គម្រោងបញ្ជ្រាបបច្ចេកវិទ្យាដើម្បីបង្កើនផលិតភាពជុំវិញតំបន់ទន្លេសាប

( TSTD — TA 7305-CAM )

# បច្ចេកទេសដាំដំណាំ




*ខែ សីហា ឆ្នាំ ២០១៣*

# អារម្ភកថា

គម្រោងបង្ហាញបច្ចេកវិទ្យាដើម្បីបង្កើនផលិតភាពជុំវិញតំបន់ទន្លេសាប (TSTD) ជាគម្រោងជំនួយ បច្ចេកទេស ដែលផ្តល់សហ-ហិរញ្ញប្បទានឥតសំណងសម្រាប់អនុវត្ត ដោយរដ្ឋាភិបាលហ្វាំងឡង់ មូលនិធិដៃគូអ៊ី-អាស៊ី និង ចែករំលែកពុទ្ធិនៃសាធារណៈរដ្ឋកូរ៉េ និង ធនាគារអភិវឌ្ឍន៍អាស៊ី (អេឌីប៊ី) ។ រាជរដ្ឋាភិបាលកម្ពុជា ចូលរួមបដិភាគមិន មែនជាថវិកា (ធនធានមនុស្ស ការិយាល័យបំពេញការងារ...) សម្រាប់អនុវត្តគម្រោង។ ធនាគារអភិវឌ្ឍន៍អាស៊ី ជាអ្នក ចាត់ចែងប្រតិបត្តិការផ្ទាល់ ជំនួសមុខឲ្យម្ចាស់ជំនួយ ។ គម្រោង កំពុងធ្វើការសាក ល្បងបង្ហាញបច្ចេកវិទ្យាកសិកម្ម និង ផ្តល់សេវាព័ត៌មានជនបទ ដើម្បីបង្កើន និង ពង្រីកប្រាក់ប្រភពចំណូលរបស់គ្រួសារកសិករខ្នាតតូច ក្នុងខេត្ត កំពង់ចាម កំពង់ធំ សៀមរាប និង បន្ទាយមានជ័យ។

គម្រោងបានអនុវត្តកម្មវិធីធ្វើបង្ហាញបច្ចេកវិទ្យាផលិតកម្មដំណាំបន្លែ ក្នុង ខេត្តកំពង់ចាម និង ខេត្តកំពង់ធំ ដោយសហការជាមួយ ក្រុមហ៊ុនគ្រាប់ពូជបន្លែ អ៊ីស្តវេស្ទ័ស៊ីដ អ៊ិនធើណេសិនណល (East West Seed International) ក្នុងរូបភាពកិច្ចសហការភាពជាដៃគូរសាធារណៈ-ឯកជន ។ អ្នកបច្ចេកទេសរបស់ក្រុមហ៊ុន បាន សហការជាមួយមន្ត្រីកសិកម្ម នៅតាមមូលដ្ឋានក្នុងខេត្តទាំងពីរ បានអនុវត្តកម្មវិធីធ្វើបង្ហាញ និងបណ្តុះបណ្តាល បច្ចេកទេសផលិតកម្មបន្លែ ដោយប្រើវិធីសាស្រ្តបង្រៀនឱ្យធ្វើអនុវត្តជាក់ស្តែង (សាលារៀនបន្លែកសិករ) ជាជំហានៗ តាមដំណាក់កាលលូតលាស់ ពេញមួយវដ្តដំណាំ។

សៀវភៅណែនាំបច្ចេកទេសសម្រាប់កសិករ ស្តីពី ***បច្ចេកទេសដាំឪឡឹក*** នេះ បានរៀបចំឡើងដើម្បីផ្តល់នូវ ចំណេះដឹង និង ចំណេះធ្វើជាក់ស្តែង ដល់គ្រួសារកសិករ ស្តីពី ការដាំដំណាំនេះ តាមបច្ចេកទេសថ្មី ដែលអាចដាំ បានគ្រប់រដូវ ពេញមួយឆ្នាំ។ បច្ចេកទេសថ្មីនេះ ជួយគ្រួសារកសិករ ឲ្យមានប្រភពចំណូលថ្មី ជាប្រចាំបន្ថែមមួយទៀត ដោយប្រើប្រាស់ឱ្យកាន់តែអស់លទ្ធភាពនូវធនធានដី-ទឹក និង ធនធានផ្សេងទៀតដែលគ្រួសារមាន ។

ខ្លឹមសារក្នុងសៀវភៅណែនាំបច្ចេកទេសសម្រាប់កសិករនេះ បានរៀបចំឡើងដោយក្រុមអ្នកបច្ចេកទេសអនុវត្ត របស់ក្រុមហ៊ុនគ្រាប់ពូជបន្លែ អ៊ីស្តវ៉េស្ទ័ស៊ីដ សម្រាប់កសិករ ដោយផ្អែកលើជំហានអនុវត្តជាក់ស្តែង និង បទពិសោធន៍ ទទួលបានជោគជ័យក្នុងការដាំដំណាំនេះ រយៈពេលពីររដូវកន្លងមក នៅក្នុងខេត្តទាំងពីរ ។ ក្នុងការរៀបឯកសារនេះ មានការចូលរួមយ៉ាងសកម្ម ក្នុងការផ្តល់គំនិត និង ការសម្រួល និងបន្ថែមខ្លឹមសារបច្ចេកទេស ក៏ដូចជា ផ្នែករចនាបថ សរសេរ និង ប្រាស្រ័យទាក់ទងផ្សព្វផ្សាយ ការកត់ត្រាសំរាប់គ្រប់គ្រងកសិដ្ឋាន និង វិភាគសេដ្ឋកិច្ចផលិតកម្ម របស់ លោក **លីវ លាងហ៊ី** ប្រធានក្រុមទីប្រឹក្សាគម្រោង និង អ្នកជំនាញផ្នែកផ្ទេរ និង ផ្សព្វផ្សាយបច្ចេកវិទ្យា។

ការអនុវត្តន៍កម្មវិធីធ្វើបង្ហាញ និងបណ្តុះបណ្តាល ស្តីពី ***ការដាំដំណាំឪឡឹក*** តាមបច្ចេកទេសថ្មីនេះ អាច ទទួលបានជោគជ័យ ដោយសារមានការគាំទ្រជាប់ជាបន្តពី ថ្នាក់ដឹកនាំ និង បុគ្គលិកក្រុមទីប្រឹក្សាគម្រោង ពី លោក **ប្រាក់ ថាវអមិដា** ប្រធានសម្របសម្រួលគម្រោង TSTD និង ជាអគ្គលេខាធិការរង នៃក្រសួងកសិកម្ម រុក្ខាប្រមាញ់ និង នេសាទ និង ពីមន្ទីរកសិកម្មខេត្ត ទាំងពីរ។

ខែ សីហា ឆ្នាំ ២០១៣

**<u>ទំនាក់ទំនងព័ត៌មានបន្ថែម</u>**

លោក លីវ លាងហ៊ី ប្រធានក្រុមទីប្រឹក្សា / អ្នកជំនាញផ្នែកផ្ទេរ និង ផ្សព្វផ្សាយបច្ចេកវិទ្យា នៃគម្រោង TSTD
អ៊ីម៉េល : livleanghy@gmail.com

## ១ ការរៀបចំដី និង ធ្វើរង



- សំអាតដីចំការ និង រើសស្មៅចេញឱ្យអស់
- ភ្ជួរ រាស់ដីឲ្យបានម៉ដ្ឋល្អ ហើយហាលឱ្យបានពី១០ ទៅ១៥ថ្ងៃ ។
- ភ្ជួរដី (គោក្របី ឬ គោយន្ត) ជម្រៅ ១៥ ទៅ ២០ សង់ទីម៉ែត្រ។

**ការលើករងដាំ:**

- ទទឹង: ១ ម៉ែត្រ និង បណ្តោយទៅតាមលទ្ធភាពដី តែមិនគួរឱ្យលើសពី១៥ម៉ែត្រ ពីព្រោះវាធ្វើឱ្យពិបាកក្នុងការថែទាំ ដូចជា ស្រោចទឹក ដកស្មៅ ជាដើម។
- កំពស់: នៅរដូវប្រាំង ពី២០ ទៅ ៣០ សង់ទីម៉ែត្រ ហើយនៅរដូវវស្សាពី ៣០ ទៅ ៥០សង់ទីម៉ែត្រ
- ដាក់ជីលាមកសត្វដែលពុកផុយ ឬ ជីកំប៉ុស្តិ៍ ក្នុងបរិមាណពី ១ ទៅ ២ គីឡូក្រាម ក្នុងផ្ទៃដីរង ១ម៉ែត្រ កប់ទ្រាប់បាតរងដោយច្របល់វាឲ្យសព្វល្អជាមួយដីរង។ (*សូមមើលតារាងប្រើប្រាស់ជី នៅទំព័រខាងមុខ)*
- គ្របរង: រងអាចគ្របបានពីរបែប ដើម្បីទប់ស្កាត់ការហូរច្រោះរង ការពារសំណើមដី និង កាត់បន្ថយការដុះស្មៅ។

*ក.ការធ្វើរង ដោយប្រើប្លាស្ទិចគ្របដី*















- ប្រើខ្សែទាញតំរង់ ដើម្បីចោះរណ្តៅដាំកូន និង ប្រើខ្នាតសម្រាប់ចោះរណ្តៅពីគុម្ពមួយ ទៅគុម្ពមួយ។
- ប្រើកំប៉ុងក្តៅសម្រាប់ចោះរណ្តៅ លើថង់ប្លាស្ទិចគម្របរង។

*ខ.ការធ្វើរង ដោយប្រើចំបើងគ្របរង*








១ ម៉ែត្រ

គំរូរង ដំណាំឪឡឹក

## ២. ការធ្វើរោងបណ្ដុះកូន

ការធ្វើរោងបណ្ដុះកូនបន្លែ គឺអាចធ្វើឱ្យគ្រាប់ដុះបានល្អ កាត់បន្ថយការរលួយកូន និង អាចការពារកូនដំណាំបានពីការឆ្លងជម្ងឺពី សត្វល្អិតចង្រៃ (ដែលមកយាយីកូនដំណាំ)។ រោងបណ្ដុះកូនបន្លែ អាចធ្វើតាមទំហំខាងក្រោម៖

- ដំបូលសំរាប់គ្របរានៈ ពី១,៨ ទៅ ២ម៉ែត្រ ដើម្បីងាយស្រួលចេញចូលថែទាំកូន។
- កំពស់រានៈ ពី ០,៨ ទៅ ១ ម៉ែត្រ ពីដី
- ទទឹងរានៈ ពី ០,៨ ទៅ ១ម៉ែត្រ
- មានដំបូលការពារទឹកភ្លៀង ហើយគ្របពីលើដំបូលដោយសំណាញ់កាត់បន្ថយកំដៅថ្ងៃ
- មានជញ្ជាំងធ្វើពីសំណាញ់មុង ដើម្បីការពារសត្វល្អិត។



## ៣. ការរៀបចំដីបណ្តុះ

- យកដី១ ភាគ លាយជាមួយនឹង ដីលាមកគោ ១ភាគ និង ផេះអង្កាមពី ៣ ទៅ ៤ភាគ។ (ផេះអង្កាមត្រូវត្រាំទឹករយៈពេល ពី៣ ទៅ ៤យប់)
- យកល្បាយដែលមាន លាយច្របល់ ហើយយកទៅលីងរហូតក្តៅសព្វទាំងអស់

*ផលប្រយោជន៍នៃការលាយល្បាយដីបណ្តុះបែបនេះ គឺ៖*

- គ្រាប់ងាយដុះ ឬសដុះលូតលាស់ល្អ
- កូនបន្លែស្រូបយកជីជាតិបានគ្រប់គ្រាន់
- សម្លាប់មេរោគ(ជម្ងឺ) ដែលបង្កឲ្យកូនបន្លែរលួយ
- សម្លាប់គ្រាប់ស្មៅចង្រៃដែលដុះដណ្តើមយកជីពីកូនបន្លែ
- សម្លាប់ពងសត្វល្អិត និង សត្វល្អិតចង្រៃក្នុងដីដែលបំផ្លាញគ្រាប់បន្លែ




*យកដីបណ្តុះដែលបានលីងហើយ ទុកឱ្យត្រជាក់សិន មុននឹងដាក់ចូលកន្ទោង ឬ ថាសបណ្តុះ*





## ៤. ការរៀបចំបណ្តុះគ្រាប់

- ត្រូវរៀបចំបណ្តុះគ្រាប់ដំណាំ ព្រមពេលជាមួយគ្នានឹងការលើករងដាំ។
- ការបណ្តុះកូនដំណាំ អាចធ្វើបានពីរបែប៖

**ក. បណ្តុះគ្រាប់ជាមុនៈ** ផ្ការគ្រាប់ រយៈពេលពីរយប់ ទើបយកទៅបណ្តុះក្នុងកន្ទោង

- យកគ្រាប់ដាក់ពង្រាយក្នុងក្រណាត់ស្បៃជក់ទឹក រុំគ្រាប់នេះឱ្យហប់ល្អ។
- ស្រោចទឹកជារៀងរាល់ថ្ងៃ ឱ្យក្រណាត់ស្បៃសើមរហូត
- ជ្រើសរើសយកគ្រាប់ដែលបែកមាត់ចាប ដាក់១គ្រាប់ក្នុង១ កន្ទោង ឬ ១ រន្ធថាសបណ្តុះ
- យកល្បាយដីបណ្តុះដាក់ក្នុងកន្ទោង ឬ រន្ធថាសបណ្តុះ ឱ្យជិតស្មើមាត់។
- យកកប់គ្រាប់ជំរៅ ១ សង់ទីម៉ែត្រ (ប្រហែល កន្លះថ្នាំងដៃ)។ បើកប់គ្រាប់ជ្រៅពេក ឬក៏ កប់គ្រាប់រាក់ពេក វាធ្វើឱ្យគ្រាប់មិនអាចដុះបាន។
- យកកន្ទោង ឬ ថាស់បណ្តុះដែលដាក់គ្រាប់រួចហើយ ដាក់ក្នុងរោងបណ្តុះ។
- ស្រោចទឹករៀងរាល់ពេលព្រឹកឱ្យជោក ។ បើដីស្ងួត វាធ្វើឱ្យគ្រាប់មិនដុះ។

**ខ.ដាក់គ្រាប់បណ្តុះដោយផ្ទាល់ក្នុងថាសបណ្តុះ ឬ កន្ទោង (ដោយមិនផ្កាប់ទុក)**

- យកល្បាយដីបណ្តុះដាក់ក្នុងកន្ទោង ឬ រន្ធថាសបណ្តុះ ឱ្យជិតស្មើមាត់។
- យកគ្រាប់ស្ងួត ចំនួន១គ្រាប់ ដាក់បណ្តុះផ្ទាល់ក្នុង ១ កន្ទោង ឬ ១ ប្រលោះ ថាសបណ្តុះ ។
- ស្រោចទឹកឱ្យជោគ ទើបយកថាសបណ្តុះ ឬ កន្ទោង ទៅដាក់ក្នុងរោងបណ្តុះ
- ស្រោចទឹករៀងរាល់ពេលព្រឹកឱ្យជោក ។ បើដីស្ងួត វាធ្វើឱ្យគ្រាប់មិនដុះ។



## ៥. ការដាំកូនឪឡឹក

- ដើម្បីកុំឱ្យកូនឪឡឹកអន់ (សន្លប់) នៅពេលដាំ គេត្រូវបន្ថយការស្រោចទឹក និងដាក់កូនឪឡឹក ឱ្យត្រូវពន្លឺថ្ងៃរយៈពេលពី ២  ទៅ ៣ថ្ងៃ ដើម្បីពង្រឹងកូន។ កូនឪឡឹកត្រូវមានអាយុពី ៨ ទៅ ១២ថ្ងៃ មុននឹងអាចយកទៅដាំបាន។



- បញ្ចូលទឹកតាមចន្លោះរង (សំរាប់រងគ្របប្លាស្ទិច) ៧ ថ្ងៃទើបអាចដាំបាន ។ ចំពោះរងគ្រប់ចំបើងវិញ ត្រូវស្រោចទឹកលើរង។
- ដាក់ជីគិមី ទ្រាប់បាតតាមរណ្ដៅ ដោយច្របល់ជាមួយនឹងដីឱ្យលាយសព្វគ្នាល្អ ពី៣ ទៅ ៥ ថ្ងៃមុនដាំ។  បន្ទាប់មក ស្រោចទឹករណ្ដៅជី ឱ្យជោគល្អ។








របៀបដកកូនដំណាំពីរន្ធថាសបណ្ដុះ គឺយកម្រាមដៃរុញបាតរន្ធ(ថាស) ឱ្យឡើងលើ រួចដៃម្ខាងទៀត ទាញដកថ្នមៗយកកូនចេញពីថាស ដើម្បីកុំឱ្យដាច់ឫសកូន។

- ត្រូវដាំកូនឪឡឹក នៅពេលរសៀល ត្រជាក់។ ដាំកូនត្រឹមដីបណ្ដុះ កុំដាំកូនកប់គល់ដើម (ដីកំណើត) ពីព្រោះ វានឹងបណ្ដាលឱ្យដើមកូនដំណាំ រលួយបាន។
- បន្ទាប់ពីដាំរួច ត្រូវស្រោចទឹកកូនឪឡឹក ឱ្យជោក។



# ៦. ការថែទាំ

## ៦.១ ការដាក់ជី

ពូជឪឡឹកកូនកាត់ ឬ អ៊ីប្រ៊ីដ យើងត្រូវដាក់ជី និងស្រោចទឹកឱ្យបាន ទៀងទាត់ទើបផ្ដល់ផ្លែបានច្រើន។ ពេលវេលា និងបរិមាណជីត្រូវដាក់ជីអាស្រ័យទៅតាមប្រភេទដី។ ដីល្បាយច្រើនជាងខ្សាច់ត្រូវដាក់ ជីចំនួន១៥ថ្ងៃម្ដង។ តែបើដីខ្សាច់ច្រើនត្រូវដាក់ជី ពី៧ ទៅ ១០ថ្ងៃម្ដង។ បរិមាណជីត្រូវដាក់នៅដីខ្សាច់ត្រូវ តិចជាងជីដាក់នៅដីល្បាយខ្សាច់ចំនួន ៣ភាគកណ្ដាល។

### បរិមាណ និង ពេលវេលាដាក់ជី

| ពេលវេលា | ប្រភេទ និង បរិមាណជី | កន្លែងដាក់ជី |
|---|---|---|
| ទ្រាប់បាត មុនពេលដាំ ១៥ថ្ងៃ | ជីសរីរាង្គ (លាមកសត្វដែលពុកផុយ ឬ កំប៉ុស្ដិ៍) ចំនួនពី ១ ទៅ ២ គីឡូក្រាម ក្នុង ១ម៉ែត្រការ៉េរង | កប់ជីកណ្ដាលរង (ពេលរៀបចំរងដាក់គម្របរង) |
| ទ្រាប់បាត (មុនដាំកូនពី ៣ ទៅ ៥ថ្ងៃ) | ជីប្រភេទ ២០-២០-១៥ ឬ ១៥-១៥-១៥ ចំនួន ៥ក្រាម (ប្រហែល កន្លះស្លាបព្រាបាយស្មើ ឬ ១ គម្របដបទឹកសុទ្ធតូច) ក្នុង១រ ណ្ដៅ | ដាក់កណ្ដាលរង កប់ច្របល់ជាមួយដី រួចស្រោចទឹករងឱ្យជោគ ឬ ដាក់កប់កណ្ដាលរណ្ដៅជម្រៅ ៣ សង់ទីម៉ែត្រ |
| ក្រោយដាំកូនបាន ៧ ថ្ងៃ | ជីអ៊ុយរ៉េ ៤៦-០០-០០ ចំនួន ១,៥ ក្រាម (ប្រហែល ១ ចុងស្លាបព្រា) ក្នុង ១ ដើម | កប់ជីចំងាយពីគល់ ៨ សង់ទីម៉ែត្រ ២ រន្ធ ក្នុង ១ ដើម |
| ក្រោយដាំកូនបាន ១៥ ថ្ងៃ | ជី ២០-២០-១៥ ឬ ១៥-១៥-១៥ ចំនួន ៥ក្រាម ក្នុង ១ ដើម | កប់ជីចំងាយពីគល់ ១៥ សង់ទីម៉ែត្រ ២ រន្ធ ក្នុង ១ ដើម |
| ក្រោយដាំកូនបាន ២៥ ថ្ងៃ | ជី ២០-២០-១៥ ឬ ១៥-១៥-១៥ ចំនួន ៥ក្រាម ក្នុង ១ ដើម | កប់ជីចំងាយពីគល់ ២៥ សង់ទីម៉ែត្រ ២ រន្ធ ក្នុង ១ ដើម |
| ក្រោយដាំកូនបាន ៣៥ ថ្ងៃ | ជី ២០-២០-១៥ ចំនួន ៥ក្រាម ក្នុង ១ដើម និង ជី ០-០-៦០ ចំនួន ៥ក្រាម ក្នុង ១ ដើម | កប់ជីចំងាយពីគល់ ២៥ សង់ទីម៉ែត្រ ២ រន្ធ ក្នុង ១ ដើម |
| ក្រោយដាំកូនបាន ៤៥ ថ្ងៃ | ជី ០-០-៦០ ចំនួន ៥ ក្រាម ក្នុង ១ ដើម | កប់ជីចំងាយពីគល់ ២៥ សង់ទីម៉ែត្រ ២ រន្ធ ក្នុង ១ ដើម |

### របៀបដាក់ជី

ដើម្បីដាក់ជីឱ្យដំណាំស្រូបយកបានច្រើន គឺ ដាក់ជីហើយភ្លាមត្រូវស្រោចទឹកភ្លាម។




ការដាក់ជីទ្រាប់បាត: ដាក់តាមពោះរង ហើយ ច្របលជាមួយដី ឬ ដាក់តាមរណ្ដៅនិមួយៗ ទើបច្របល់ដីក្នុងរណ្ដៅ ឱ្យសព្វ។

ការដាក់ជីបំប៉ន: កប់ជីក្នុងរន្ធ ចោះសងខាងរណ្ដៅ (ចំងាយពីគល់ ពី ៨ ទៅ ២៥ សង់ទីម៉ែត្រ ទៅតាមអាយុដំណាំ)។

## ៦.២ ការស្រោចទឹក

- ស្រោចទឹកនៅពេលព្រឹក ដោយបញ្ចូលទឹកតាមចន្លោះរង ។ បើស្រោចទឹកនៅពេលថ្ងៃត្រង់ ឬ នៅពេលល្ងាច វាអាចបណ្តាលឱ្យមានបញ្ហា ដូចជា រលួយ ឬ រលាកដើម។
- ត្រូវស្រោច(បញ្ចូល)ទឹកឱ្យបានទៀងទាត់ ។ មិនត្រូវឱ្យដីស្ងួត ជាពិសេសបន្ទាប់ពីដាំកូនហើយ ពីព្រោះកូនឪឡឹកត្រូវការទឹកនិងដី សំរាប់ការដុះលូតលាស់ ឫស ដើម ស្លឹក។ នៅពេលចេញផ្កា ត្រូវស្រោចទឹកឱ្យបានទៀងទាត់ផងដែរ។ បើស្រោចទឹក មិនបានគ្រប់គ្រាន់ គឺ វាធ្វើឱ្យការចេញផ្កា និង ផ្លែ មិនបានល្អ។
- បើពិនិត្យឃើញដីនៅក្បែរគល់ស្ងួត (*សំគាល់ដោយ មិនអាចលុញជាដុំមូលបាន*) ត្រូវស្រោចទឹកបន្ថែម។ បើដីនៅក្បែរគល់សើមខ្លាំង (*សំគាល់ដោយ ច្របាច់ដីមានទឹកហៀរតាមម្រាមដៃ*) មិនត្រូវដាក់ទឹកបន្ថែមទេ ។ បើដាក់ទឹកច្រើន នឹងអាចងាយធ្វើឱ្យដីដក់ទឹកខ្លាំង ធ្វើឱ្យឪឡឹករលួយឫស ដើមងាប់បាន។



## ៦.៣ ការតាក់តែងមែក

ការកាត់ខ្នែងឪឡឹក ត្រូវធ្វើនៅពេលវាមានស្លឹក (ថ្នាំង) ទី៥ ។ នៅពេលនោះ យើងត្រូវកាត់ត្រួយនៅស្លឹកទី ៦ ហើយវានឹងចេញខ្នែង ៥ ពីស្លឹកថ្នាំងដែលទុក។ ក្នុងចំណោម ត្រួយខ្នែងទាំង ៥ យើងត្រូវទុកតែត្រួយចំនួន ២ ទៅ ៣ (គឺ ត្រួយណា ដែលលូតលាស់ថ្លុះល្អ) ។ ត្រូវរាប់ពីស្លឹកចេញពីដើមមេទៅ ចំនួន ១២ ស្លឹក (ថ្នាំងដើមខ្នែង) ត្រូវបេះផ្កាញី ចោលទាំងអស់។ ដូចនេះផ្កា និង ក្តិបត្រូវសំឡឹងមើល និង ទុកចាប់ពីស្លឹក/ថ្នាំង ទី ១៣ ឡើងទៅ ។ គេត្រូវជ្រើសរើសក្តិបដែលល្អជាងគេ ក្នុងខ្នែងនិមួយៗ ហើយទុកតែក្តិបមួយនោះ ឱ្យទៅជាផ្លែធំ។




ដើមមេកាត់(ក្រៀវ)ត្រួយ នៅស្លឹក(ថ្នាំង)ទី ៥

### ៦.៤ ការធ្វើស្មៅ

ត្រូវធ្វើស្មៅឱ្យបានស្អាត ទោះបីជារងប្រើចំបើង ឬ ប្លាស្ទិចគ្របដី ក៏ដោយ ។ គេត្រូវដកស្មៅនៅតាមចន្លោះរង ចេញ ពិព្រោះវាជាជម្រកសត្វល្អិតចង្រៃដែលបំផ្លាញ និង ចម្លងជម្ងឺដល់ដំណាំឪឡឹក។

## ៧. ជម្ងឺ សត្វល្អិតចង្រៃ

### ៧.១ ជំងឺទុំលឿងស្លឹក

ជម្ងឺនេះ កើតមានលើស្លឹក។ យើងអាច សង្កេតឃើញមានចំណុចអុចពណ៌លឿង រាងជ្រុងៗ ហើយដុំពណ៌នេះ ប្រែជាពណ៌ត្នោត។ នៅពីក្រោមផ្ទៃ ស្លឹកមានដុំជាំស្លឹករាងជ្រុងៗ។



| បញ្ឈប់ការរាលដាល ជម្ងឺទុំលឿងស្លឹក | បង្ការទប់ស្កាត់ ជម្ងឺទុំលឿងស្លឹក |
|---|---|
| ១. បេះស្លឹកមានជម្ងឺចេញពីដើម ដោយដៃ ឬ ដោយកូនកាំបិត ឬ កន្ត្រៃ) រួចយកស្លឹកនេះទៅកប់។<br>២. បាញ់ថ្នាំមេតាឡាកស៊ីល (Metalaxyl) ដោយឆ្លាស់គ្នាជាមួយថ្នាំម៉ង់កូសិប (Mancozeb) នៅពេលថ្ងៃល្ងាច<br>៣. កុំស្រោចទឹកជោគជាំពេក | ១. ពង្រីកចន្លោះជួរ និង គុម្ពដាំឪឡឹក<br>២. កំចាត់ស្មៅចង្រៃ និង ដំណាំអត់ប្រយោជន៍<br>៣. បេះស្លឹកទើបចាប់មានរោគសញ្ញាជម្ងឺ ចេញ រួចយកស្លឹក នេះទៅកប់។<br>៤. បាញ់ថ្នាំ មេតាឡាកស៊ីល (Metalaxyl) ឬ ហ្វូសេទីល-អាល់មេទីល (Fosetyl-Al) ការពារជម្ងឺក្នុងតំបន់ដែលមានសំណើមខ្លាំង។ |

### ៧.២ ដង្កូវស៊ីញ៉ែ

ដង្កូវស៊ីញ៉ែជាប្រភេទដង្កូវម្យ៉ាង ដែលស៊ីបំផ្លាញកោសិកាស្លឹក ហើយជាមូលហេតុ ធ្វើឲ្យរុក្ខជាតិ មិនអាចធ្វើរស្មី សំយោគបាន។



**វិធានការការពារ**

- ត្រូវក្តិចស្លឹកដែលរងការបំផ្លាញចេញ ដោយដាក់ក្នុងថង់ប្លាស្ទិច រួចយកទៅកប់ ឬ ដុតចោល (ហាមក្តិចបោះចោលក្នុងចំការ)
- ប្រើថ្នាំពុលកសិកម្ម
  - ⇒ អាបាមិចទីន (Abamectin)
  - ⇒ ឌីណូតីហ្វូយរង់ (Dinotefuran)

សំគាល់៖ ត្រូវបាញ់ថ្នាំផ្សិតពី៥ ទៅ ៧ថ្ងៃម្តងនៅពេលថ្ងៃល្ងាច។ ថ្នាំផ្សិតត្រូវបាញ់ ពីខាងក្រោមនិងខាងលើផ្ទៃស្លឹក។ ជាការប្រសើរ ត្រូវលាយជាមួយទឹកស្អិត ដើម្បីឱ្យថ្នាំនៅជាប់នឹងស្លឹក បានយូរ។

## ៧.៣ ទ្រីប





ត្រូវពិនិត្យ វែកឆែករកមើល សត្វទ្រីបឲ្យបានញឹកញាប់ ជាពិសេសនៅផ្នែកត្រួយ។ ទ្រីប គឺជាមូលហេតុធ្វើឲ្យត្រួយដំណាំ ឈប់ការលូតលាស់។

**វិធានការការពារ**

- ត្រូវបាញ់ទឹកស្រោចឲ្យចំត្រួយដំណាំ (បើមានលទ្ធភាព១ថ្ងៃ ២ដង)
- បន្ថយការប្រើប្រាស់ជី អ៊ុយរ៉េ (៤៦-0-0)
- ប្រើថ្នាំពុលកសិកម្ម
  - ⇒ អាបាមិចទីន (Abamectin)
  - ⇒ ឌីណូតឺហ្វុយរង់ (Dinotefuran)
  - ⇒ អ៊ីមីដាក្លប្រ៊ីត (Imidacloprid)
  - ⇒ ថាយាមេតូហ្សាម (Thiamethoxam)

## ៧.៣ ចៃ



ត្រូវឆែករកមើលចៃឱ្យបានញឹកញាប់នៅផ្នែក ខាងក្រោមស្លឹក។ ចៃជញ្ជក់ស្លឹក ត្រួយខ្ចី ធ្វើឱ្យស្លឹក និង ត្រួយរួញ ។ នៅពេលពិនិត្យឃើញមានពពួកចៃនេះ យើងត្រូវកំចាត់វាជាបន្ទាន់ ព្រោះវា គឺជាភ្នាក់ងារ ចម្លងជម្ងឺ វីរ៉ុស។ វិធានការសម្រាប់ កំចាត់ពពួកនេះមានដូចជា ៖

- កាត់ស្លឹកដែលមានចៃ កប់ចោល ឬ ដុត ឬ ញេចចៃដោយដៃ
- ប្រើថ្នាំពុលកសិកម្ម៖
  - អាបាមិចទីន (Abermectin)
  - ឌីណូតហ្វុយរង់ (Dinotefuran)
  - ហ្វីប្រូនីល (Fipronil)

សំគាល់៖

- មិនត្រូវយកថ្នាំពុលកសិកម្ម លាយចូលគ្នា សំរាប់បាញ់ទេ។
- ត្រូវជ្រើសរើសយកក្បាលបាញ់ថ្នាំ ដែលមានលក្ខណៈសាចល្អ។ ត្រូវប្រើទឹកស្អិតលាយជាមួយថ្នាំសំរាប់បាញ់។
- ត្រូវបាញ់នៅពេលល្ងាច ដោយបាញ់នៅតាមត្រួយស្លឹក ឱ្យបានសព្វល្អ

## ៨. ការប្រមូលផល




- ឪឡឹកអាចប្រមូលផលបានបន្ទាប់ពីដាំកូនបានរយៈពេល ពី៥០ ទៅ ៦០ ថ្ងៃ អាស្រ័យទៅតាមប្រភេទពូជ។
- ត្រូវបេះផ្លែឪឡឹកឱ្យជាប់នឹងទង ដើម្បីរក្សាគុណភាពផ្លែ
- ត្រូវប្រើកាំបិតសំរាប់កាត់ទងឪឡឹក ។
- មិនត្រូវទាញកន្ត្រាក់ផ្លែ ផ្តាច់ចេញពីដើម ឡើយ។

## ៨. ការកត់ត្រាចំណាយចំណូលផលិតកម្ម និង វិភាគសេដ្ឋកិច្ច

### ៨.១. ការកត់ត្រាចំណាយចំណូលផលិតកម្ម

ការកត់ត្រាទុកនូវតួរលេខន៍ចំណាយចំណូល មានសារៈសំខាន់ណាស់ ។ មាន ហេតុផលជាច្រើន ដែលគេចាំបាច់ត្រូវកត់ត្រាជាប្រចាំ ពីចំណាយចំណូលផលិតកម្ម ។ ហេតុផលចំបងមួយចំនួន មានដូចជា៖

ប្រសិនបើគ្មានការកត់ត្រាពីអ្វីដែលត្រូវបានចំណាយ ហើយអ្វីដែលបានចំណូលនោះទេ យើងនឹងមិនអាចដឹងបានទេ ថាតើ មុខជំនួញ (ដូចជា *ការដាំបន្លែ*) របស់យើង ខាត ឬ ចំណេញ? ចូរចងចាំថា *ការទទួលបានប្រាក់ចំណូលរាល់ថ្ងៃ មិនមានន័យថា យើងបានទទួលប្រាក់ចំណេញនោះទេ* ។

ប្រសិនបើយើងដឹងច្បាស់ពីមុខចំណាយ និង មុខចំណូលច្បាស់លាស់ យើងអាចរិះរកវិធីដើម្បី គ្រប់គ្រងជំនួញឲ្យបានកាន់តែល្អ កាន់តែបានចំណេញច្រើន។

កំណត់ត្រាអាចត្រូវប្រើប្រាស់សម្រាប់ធ្វើផែនការចំណាយនៅពេលអនាគត ពីព្រោះយើងអាចដឹងពីតំលៃ និង ធនធានដែលត្រូវចំណាយ ។

គោលដៅចំបងនៃធ្វើជំនួញ ឬ ផលិតកម្មអ្វីមួយ គឺរកបានចំណេញ និង កាន់តែចំណេញច្រើន ។ ប្រាក់ចំណេញ ជា ផលសង (ឬ គាពខុសគ្នាជាវិជ្ជមាន) រវាង ប្រាក់ចំណូល (បានមកពីការលក់ផលិតផល ឬ សេវាកម្ម) និង ប្រាក់ចំណាយទាំងអស់ ។ ចំណាយ អាចបែងចែកជា ២ ប្រភេទ គឺ ៖

(១) ចំណាយថេរ (មិនប្រែប្រួល*) គឺជា ចំណាយមូលធន ដែលប្រើមួយសារមិនខូច ឬ មិនអស់ ដូចជា ដី សំណង់ ឃ្លាំង សម្ភារៈសាងសង់ទ្រើងត្រសក់ ធុងស្រោច ម៉ាស៊ីនបូមទឹក ប្រព័ន្ធស្រោចស្រពដំណក់ទឹក រោងបណ្ដុះផ្សិត ទ្រុងមាន់ គ្រឿងចក្រ...... ដែលមានតំលៃ (ត្រូវកាត់រំលស់) ជាប្រចាំ ទោះជាមានការផលិត ឬក៏ គ្មានការផលិតក៏ដោយ ។ ដោយសារឧបករណ៍ និង សម្ភារៈ ក្នុងមុខចំណាយ*មិនប្រែប្រួល* ទាំងនេះ អាចប្រើបានច្រើនដង (ប្រើម្ដងមិនអស់) ហើយ អាចប្រើនៅក្នុងផលិតកម្ម សារក្រោយៗ បានទៀតនោះ គេត្រូវគិតរំលស់វា ជាច្រើនសារ/ដង ។ ការកំណត់ចំនួនសាររំលស់ថ្លៃឧបករណ៍ និង សម្ភារៈ ក្នុងប្រភេទចំណាយថេរនេះ អាចគិតបានច្រើនបែប ដូចជា តាមចំនួនសារ (ដង) ផលិតកម្ម តាមអាយុកាល (រយៈពេល) អាចនៅប្រើបានរបស់វា ...... ។

* *មិនប្រែប្រួល* បានន័យថា៖ នៅពេលទិញ ឬ សាងសងហើយ (គឺថា បានចំណាយហើយ) ទោះបីបានប្រើ ឬ មិនបានប្រើក្ដី សម្រាប់ការផលិតទំនិញ(ផលិតផល)អ្វីមួយ ក៏ដោយ ក៏គុណភាព (គឺថា វាក្លាយបន្តិចម្ដងៗ ទៅជារបស់ចាស់ សឹករេចរិល...... ) ហើយ តំលៃរបស់វា នឹងត្រូវធ្លាក់បង់បន្តិចម្ដងៗ ទៅតាមនោះដែរ។

(២) ចំណាយប្រែប្រួល គឺជាប្រភេទចំណាយជាក់ស្តែងសម្រាប់ការផលិតមុខផលិតផល ឬ សេវាកម្មអ្វីមួយ។ ការចំណាយប្រភេទនេះ រួមមាន វត្ថុធាតុដើម ដូចជា គ្រាប់ពូជ ជី ថ្នាំ កំបោរស ការរៀបចំដី ថ្លៃបូមទឹកស្រោចស្រព ពលកម្ម...... ដែលត្រូវការ ចាំបាច់សម្រាប់ផលិតរបស់ ឬ ផលិតផលអ្វីមួយ (ដូចជា បន្លែ ផ្សិតចំបើង ពោត សណ្តែកមាន់ ជ្រូក......) ។

ដើម្បីឲ្យដឹងច្បាស់ ថាតើគោលដៅជោគជ័យជំនួញ សម្រេចបានត្រឹមណានោះ គេត្រូវការព័ត៌មានជាចាំបាច់ ដែលមិនអាចរកបាន ក្រៅពីការកត់ត្រាជាប្រចាំ និង បានត្រឹមត្រូវរបស់យើង នោះឡើយ ។ ការកត់ត្រា អាចផ្តោតលើការប្រមូលព័ត៌មានចាំបាច់ សម្រាប់វិភាគចំណាយ និង ចំណេញ និង តម្រង់ទិសមុខរបរ ឬ ផលិតកម្ម តាមពេលវេលា ឲ្យចំឆ្លើយតបតាមតម្រូវការទីផ្សារ និង ទៅអនាគតខាងមុខ ។ ខាងក្រោមនេះ ជាទម្រង់កត់ត្រាគំរូសាមញ្ញមួយ ដែលកសិករ (*អ្នកដាំបន្លែ*) អាចប្រើសម្រាប់កត់ត្រាចំណាយ ចំណូលរបស់ខ្លួន ។

ក. តារាងចំណាយ

| ឈ្មោះផលិតកម្ម:.........................................<br>ថ្ងៃចាប់ផ្តើមផលិតកម្ម:...................................... | | | ថ្ងៃបញ្ចប់ផលិតកម្ម:......................... | | |
|---|---|---|---|---|---|
| **លរ** | **មុខចំណាយ** | **ឯកតា** | **ចំនួន** | **តំលៃ ១ឯកតា** | **ទឹកប្រាក់សរុប** |
| | | | | | |
| | | | | | |
| | | | | | |
| | | | | | |
| | | | | | |
| | | | | | |

ខ. តារាងចំណូល

| ឈ្មោះផលិតកម្ម:.........................................<br>ថ្ងៃចាប់ផ្តើមផលិតកម្ម:...................................... | | | ថ្ងៃបញ្ចប់ផលិតកម្ម:......................... | | |
|---|---|---|---|---|---|
| **លរ** | **មុខចំណូល** | **ឯកតា** | **ចំនួន** | **តំលៃ ១ឯកតា** | **ទឹកប្រាក់សរុប** |
| | | | | | |
| | | | | | |
| | | | | | |
| | | | | | |
| | | | | | |
| | | | | | |

## ៨.២. តារាងគំរូ សម្រាប់វិភាគចំណាយចំណូលផលិតកម្មដំណាំបន្លែ

| | |
|---|---|
| កសិករៈ | នៅៈ |
| ដំណាំៈ *(ត្រសក់ទ្រើង)* | ពូជៈ |
| ថ្ងៃចាប់ផ្តើមៈ | ថ្ងៃប្រមូលផលៈ |
| ផ្ទៃដីៈ (ម៉ែត្រការ៉េ) | ចំនួនដើមៈ |

| បរិយាយ | ឯកត្តា | ចំនួន ឯកត្តា | តម្លៃ ១ ឯកត្តា | ទឹកប្រាក់ សរុប | ចំនួនសារ វិលស់ | ប្រាក់សរុប ១ រដូវ (រៀល) |
|---|---|---|---|---|---|---|
| **១-ចំណូល** | | | | | | |
| ក-ប្រាក់ចំណូលដែលលក់បាន | គីឡូក្រាម | | | | | |
| ខ-មិនមែនជាប្រាក់ចំណូល(ហូប) | គីឡូក្រាម | | | | | |
| **ចំណូលសរុប** | | A | | | | |
| **២ក-ចំណាយប្រែប្រួល** | | | | | | |
| កម្លាំងពលកម្ម (សរុប ១វគ្គដាំដុះ) | ថ្ងៃ (ឬ ម៉ោង) | | | | | |
| គ្រាប់ពូជ | កញ្ចប់ | | | | | |
| ជីគីមី | សរុបរួម | | | | | |
| ជីធម្មជាតិ | គីឡូក្រាម | | | | | |
| ជីទឹកជំនួយលូតលាស់ | កញ្ចប់ | | | | | |
| ថ្នាំកំចាត់ជម្ងឺផ្សិត | សរុបរួម | | | | | |
| ថ្នាំកំចាត់សត្វល្អិត | សរុបរួម | | | | | |
| ម៉ាស៊ីនបូមទឹក | ប្រេងដែលប្រើ | | | | | |
| អន្ទាក់ចាប់សត្វល្អិត | ឈុត | | | | | |
| **សរុបចំណាយ ប្រែប្រួល (TVC)** | | | | | | |
| *៣ក-ចំណេញ ធៀប ចំណាយប្រែប្រួល* | | | | | | |
| **២ខ-ចំណាយមិនប្រែប្រួល/ថេរ(ត្រូវរំលស់)** | | | | | | |
| កៅស៊ូប្លាស្ទិចគ្របដីរង | ម៉ែត្រ | | | | | |
| បង្គោលចំណារ/ទ្រើង | ដើម | | | | | |
| ខ្សែទ្រើង | គីឡូក្រាម | | | | | |
| ថាសបណ្តុះកូន | ថាស | | | | | |
| សំណាញ់ទ្រើង | ដុំ | | | | | |
| **សរុបចំណាយមិនប្រែប្រួល ថេរ (TFC)** | | | | | | |
| **២គ-ចំណាយសរុប** (TC = TVC+TFC ) | | | | | | TC |
| *៣ខ-ចំណេញ ធៀប ចំណាយសរុប* (TC) | | | | | | B |
| | | | | | | |
| **ថ្លៃដើម ១ គីឡូ (រៀល)** | | | | | | = TC / A |
| **ចំណេញ ១ គីឡូ (រៀល)** | | | | | | = B / A |

